


វិទ្យាស្ថានស៊ីតិក
SETEC INSTITUTE

# ពិធីបុណ្យភ្ជុំបិណ្ឌ

Year 1 Semester 2
Group ASJ2
Lecture by: Vthou

# បញ្ចប់បទបង្ហាញនេះអ្នកនឹងដឹង

១

និយមន័យបុណ្យភ្ជុំបិណ្ឌ

២

ប្រវត្តិបុណ្យភ្ជុំបិណ្ឌ

៣

មូលហេតុដែលប្រារព្ធពិធីបុណ្យភ្ជុំបិណ្ឌ

៤

ព័ត៍មានទាក់ទងនឹងពិធីបុណ្យភ្ជុំបិណ្ឌ



បុណ្យភ្ជុំបិណ្ឌ ជាពិធីបុណ្យមួយ ក្នុងចំណោមពិធីបុណ្យធំៗដទៃទៀតនៃ ព្រះរាជពិធីទ្វារទសមាស ប្រជារាស្ត្រទូទាំងព្រះរាជាណាចក្រកម្ពុជាតាំងពីបុរាណរៀងមក (ពុំដឹងពីពេលណាច្បាស់លាស់) តែងតែមាន ប្រារព្ធពិធីនេះមិនដែលអាក់ខានឡើយ គឺចាប់ពីថ្ងៃ ១រោច ខែភទ្របទ រហូតដល់ថ្ងៃទី ១៥រោច មានរយៈពេល ១៥ថ្ងៃ ដែលយើងហៅថាបិណ្ឌ1, បិណ្ឌ2 ... និងថ្ងៃបញ្ចប់ គឺជា ថ្ងៃ "ភ្ជុំបិណ្ឌ"។ បុណ្យភ្ជុំបិណ្ឌ ត្រូវបានធ្វើឡើងតាមបែបព្រះពុទ្ធសាសនា។

ជារៀងរាល់ឆ្នាំ នៅពេលដល់ថ្ងៃខែដែលត្រូវប្រារព្ធពិធីបុណ្យភ្ជុំបិណ្ឌ គ្រប់បងប្អូនកូនចៅ សាច់ញាតិសន្តានទាំងអស់ ទោះនៅទីជិតឬទីឆ្ងាយ តែងតែធ្វើដំណើរទៅជួបជុំគ្នា ជាពិសេសឪពុកម្តាយ ដើម្បីរៀបចំម្ហូបអាហារ បាយសម្ល ចង្ហាន់យកទៅប្រគេនព្រះសង្ឃដែលគង់នៅវត្តអារាម។







- ពាក្យថា "ភ្ជុំបិណ្ឌ" មកពីពាក្យ "ភ្ជុំ" រួមគ្នាជាមួយពាក្យ "បិណ្ឌ" ដែលមានន័យថា ភ្ជុំគឺការប្រមូលផ្ដុំ ឬប្រជុំបិណ្ឌ (មកពីភាសាបាលី) "ដុំបាយ" ដូច្នេះយើងអាចសម្គាល់ពាក្យនេះ តាមវិធីងាយបានថា គឺជា "ការប្រជុំ ឬប្រមូលផ្ដុំដុំបាយ" (ការពូតដុំបាយជាដុំៗដែលយើងហៅថា "បាយបិណ្ឌ“ ។

- បើតាមតម្រាចារតាមប្រវត្តិសាស្ត្រនៃប្រទេស កម្ពុជាយើង បានបង្ហាញថាពិធីបុណ្យភ្ជុំបិណ្ឌគឺកើតមានតាំងពីបុរាណកាលមកម្ល៉េះ។ ប៉ុន្តែទាស់ត្រង់ថា កាលពីសម័យមុនគេមិនហៅថា បុណ្យភ្ជុំទេ ដោយនៅក្នុងពិធីនេះគេមានបែងចែកចេញជាពីរថ្នាក់។ ថ្នាក់ដំបូង គឺគេចាប់ផ្ដើមធ្វើចាប់ពីថ្ងៃ ១រោច រហូតដល់ថ្ងៃ១៤រោច ជាវារកភត្ត (ភត្តធ្វើតាមថ្ងៃ) ជាបន្តបន្ទាប់។ ចំណែកមួយថ្នាក់ទៀតគេធ្វើនៅថ្ងៃ ១៥រោច ដែលគេហៅថាបុណ្យភ្ជុំ។ ពិធីបុណ្យទាំងពីរថ្នាក់នេះ បច្ចុប្បន្នត្រូវបានយើងបូកបញ្ចូលគ្នាហើយហៅកាត់ថា ពិធីបុណ្យបិណ្ឌភ្ជុំនេះឯង។



# ៣

## មូលហេតុដែលប្រារព្ធពិធីបុណ្យភ្ជុំបិណ្ឌ

ប្រជាជនខ្មែរ ក៏តែងតែចងចាំ និងយល់គ្រប់ៗគ្នាថា "បុណ្យភ្ជុំបិណ្ឌ" គឺជាការធ្វើបុណ្យដាក់បិណ្ឌ ដើម្បីឧទ្ទិសដល់ បេតបុគ្គលជាឪពុក ម្ដាយ បងប្អូន ញាតិសន្ដានទាំងឡាយ ដែលបានចែកស្ថានទៅ ហើយ មិនដឹងជា ទៅចាប់កំណើតនៅ លោកខាងមុខជាអ្វីនោះ។ ប៉ុន្តែបើ តាមអត្ថបទរបស់ លោក សុង ស៊ីវ វិញការធ្វើបុណ្យភ្ជុំបិណ្ឌ ពុំមែនមានន័យតែប៉ុណ្ណឹងទេ គឺលោកបានបកស្រាយដោយលើកយកអត្ថន័យចំនួន ៣ គឺ :

ដើម្បីឧទ្ទិសកុសលចំពោះបេតបុគ្គល ឬប្រេតបុគ្គល ( ពាក្យ "បេត" ជាពាក្យបាលី ឯពាក្យ "ប្រេត" ជាពាក្យសំស្ក្រឹត )

ដើម្បីឲ្យបានសេចក្ដីសុខចម្រើន សិរីសួស្ដីដែលកើតពីផលទានរបស់ខ្លួន។

ដើម្បីបង្កើតសាមគ្គីរបស់ជាតិ គឺការស្រុះស្រួលគ្នាទាំងពេលវេលាកំណត់ទាំងការធ្វើនំគម អន្សម ពេញទូទាំង ព្រះរាជាណាចក្រកម្ពុជា យើងក៏អាចកត់សម្គាល់ នូវពាក្យមួយទៀតថា "បុណ្យសែនដូនតា" ដែលជាពាក្យសាមញ្ញសម្រាប់ប្រជារាស្ត្រខ្លះ ព្រោះថាពាក្យទាំងពីរគឺមានន័យដូចគ្នា។




កាលពីសម័យបុរាណកាល គេធ្វើពិធីបុណ្យនេះគឺដើម្បីរៀបចំធ្វើសង្ឃភត្ត ទំនុកបម្រុងព្រះសង្ឃដែលគង់ចាំវស្សាក្នុងវត្តរយៈពេល៣ខែ ចាប់តាំងពីថ្ងៃចូលវស្សារហូតដល់ថ្ងៃចេញវស្សា។ នៅក្នុងចំណោរកាលបុរាណបានចារថា ដោយនៅក្នុងរដូវវស្សាមានភ្លៀងធ្លាក់ជោកជាំ រលឹមពព្រិច ធ្វើឲ្យមានការលំបាកដល់ព្រះសង្ឃក្នុងពេលធ្វើគោចរបិណ្ឌបាត។ ហេតុដូច្នេះ ទើបបណ្ដាពុទ្ធបរិស័ទនាំគ្នារៀបចំពិធីនេះ ដើម្បីផ្គត់ផ្គង់ព្រះសង្ឃប្រចាំថ្ងៃរហូតដល់ថ្ងៃចេញវស្សា។ ម្យ៉ាងវិញទៀត នៅក្នុងពិធីបុណ្យនេះ គឺធ្វើឡើងដើម្បីផ្សាយឧទ្ទិសកុសលដល់ពពួកបេតជនញាតិ និងញាតិទាំង៧សណ្ដាន ព្រមទាំងគំណញាតិច្រើនមហាកប្បនោះផងដែរ តាមរយៈអនុភាពនៃសង្ឃគតាទក្ខិណាទាន ដែលរស់រងទុក្ខវេទនា កើតជាប្រេតមានកម្មពៀរ ជាប់ទោសធ្ងន់ រងកម្មក្រហល់ក្រហាយអត់ឃ្លានទាំងអស់នោះ បានរួចផុតពីក្ដីលំបាកសោកសៅ។








# ព័ត៌មានទាក់ទងនឹង
# ពិធីបុណ្យភ្ជុំបិណ្ឌ



# ទំនាក់ទំនងបុណ្យភ្ជុំបិណ្ឌ និងបុណ្យចូលវស្សា

បើតាមសង្ឃដីការបស់ សម្តេចព្រះមង្គលទេពាចារ្យ អ៊ុំ ស៊ុម បានឲ្យដឹងថា នៅសម័យដើមគឺ ក្រោយពេល ដែល ព្រះពុទ្ធសាសនាបានផ្សាយចូលមកក្នុងប្រទេសខ្មែរយើង ហើយនោះភិក្ខុសង្ឃបាននិមន្ត ទៅបិណ្ឌបាតគ្រប់ច្រកល្ហករាល់ពេលវេលា ដោយមិនគិតថា ជារដូវវស្សា រដូវប្រាំង រដូវក្តៅ ឬរដូវរងាឡើយ ។

លុះដល់សម័យស្តេចសោយរាជ្យ គឺវង្ស "ជ័យវរ្ម័ន" ព្រះអង្គមានព្រះទ័យជ្រះថ្លានឹងព្រះពុទ្ធសាសនា ក៏បានឧបត្ថម្ភព្រះសង្ឃដែលបួសក្នុង ព្រះពុទ្ធសាសនា ដោយបច្ច័យបួន មានចង្ហាន់បិណ្ឌបាត្រ សេនាសណៈ ភេសជ្ជៈ និង ចីវរ ។ ក្រោយមកទៀត ព្រះអង្គទ្រង់យល់ឃើញថានៅរដូវវស្សាព្រះសង្ឃនិមន្តចេញទៅបិណ្ឌបាត្រ នោះជួបប្រទះនូវការលំបាក ខ្លាំងណាស់ដូចជា ភ្លៀង ផ្គររន្ទះ ខ្យល់បក់បោកដែល បណ្តាលឲ្យព្រះសង្ឃអង្គខ្លះ ត្រូវដួលលើភក់ជ្រាំនោះ ក៏នាំឲ្យព្រះអង្គកើត ព្រះទ័យសង្វេគផង ជ្រះថ្លាផង ហើយក៏បានបវរណា ដល់ព្រះសង្ឃក្នុង ព្រះរាជាណាចក្រកម្ពុជា ឲ្យនិមន្តគង់នៅក្នុងវត្ត ហើយកុំនិមន្តចេញ បិណ្ឌបាត្រឯណា ក្នុងរយៈពេល ៣ខែ មិនតែប៉ុណ្ណោះព្រះអង្គក៏បានធ្វើជា ព្រះរាជប្រកាសផ្សព្វផ្សាយ ឲ្យប្រជារាស្ត្រទាំងអស់ក្នុង ព្រះរាជាណាចក្រកម្ពុជា ជួយឧបត្ថម្ភបច្ច័យបួនដល់ ព្រះសង្ឃក្នុង រយៈពេលនៃ រដូវវស្សាកុំឲ្យ ព្រះសង្ឃនិមន្តបិណ្ឌបាត្រ នៅខាងក្រៅទៀត។

ការអនុវត្តន៍បែបនេះ ចេះតែក្លាយបន្តិចម្តងៗ ប្រជារាស្ត្រក៏ធ្វើតាម ព្រះរាជារហូតមក គឺឲ្យតែដល់រដូវវស្សា រយៈពេល ៣ខែ ដោយគិតចាប់ពីថ្ងៃ ១ រោច ខែអាសាឍ ដល់ថ្ងៃពេញបូរមីខែអស្សុជមិនឲ្យព្រះសង្ឃទៅណាទេ ( គឺនៅសម័យនោះ គេដាក់បិណ្ឌក្នុង រយៈពេល ៣ខែ តែក្រោយៗមកក៏សល់រយៈពេលតិចទៅ។ រហូតមកដល់សព្វថ្ងៃនេះ អាស្រ័យដោយកត្តាជីវភាពរស់នៅក្នុងសង្គមមានការប្រែប្រួល )។




ចាប់តាំងពីសម័យបុរាណកាលរហូតមកដល់បច្ចុប្បន្ននេះ ពិធីបុណ្យភ្ជុំបិណ្ឌនេះ គេតែងតែប្រារព្ធនៅក្នុងរដូវវស្សា ព្រោះនៅក្នុងរដូវនេះពពួកប្រេតអាចមានឱកាសច្រើនក្នុងការស្វែងរក ចំណីអាហារ ជាងរដូវផ្សេងៗទាំងអស់។ ម្យ៉ាងវិញទៀតនៅក្នុងវស្សានរដូវអាហាររបស់ពួកប្រេត ដូចជាភក់ជ្រាំ ស្លេស្ម កំហាក សាកសព និងកាកសំណល់អសោចិ៍ សម្បូរនៅក្នុងខែភ្លៀងធ្លាក់ញឹកញាប់ពព្រិច។ នៅក្នុងរដូវបុណ្យភ្ជុំបិណ្ឌរយៈ ពេល១៥ថ្ងៃនេះ មានពពួកបេតជន (ពួកប្រេត) សាច់ញាតិទាំងប្រាំពីរសណ្ដាន ព្រមទាំងតំណញាតិច្រើនមហាកប្ប ដែលអត់ឃ្លានអាហារអស់រយៈ ពេលជាច្រើនខែមកហើយនោះ ត្រូវបានរួចផុតពីការឃុំឃាំងអនុញ្ញាតឲ្យមកស្វែងរកសាច់ញាតិនៅ តាមវត្តអារាមផ្សេងៗ ដែលនាំយកចំណីអាហារផ្សេងៗ មកឧទ្ទិសកុសលឲ្យខ្លួន។ ម្យ៉ាងវិញទៀត បើតាមសម្ដីចាស់ៗបុរាណនិយាយតៗគ្នាថា ក្នុងរយៈពេល១៥ថ្ងៃ បើពពួកបេតជនទាំងអស់នោះដើរស្វែងរកញាតិចំនួន៧វត្ត នៅតែមិនឃើញនោះ ពពួកប្រេតទាំងអស់នោះនឹងស្រែកយំទន្ទ្រាំជើង ព្រោះតែការខកបំណង និងភាពស្រេកឃ្លានក្រហល់ក្រហាយក្នុងចិត្ត។ ជាពិសេសពពួកបេតជនទាំងអស់នោះ នឹងដើរដាក់បណ្ដាសាដល់សាច់ញាតិ កូនចៅជាមិនខាន។





ចំពោះបុណ្យភ្ជុំបិណ្ឌនេះ បុរាណាចារ្យរាជបណ្ឌិតខ្មែរយើងបានរៀបចំរយៈពេល១៥ថ្ងៃ ដោយចាប់គិតពីថ្ងៃទី០១រោច ដល់ថ្ងៃទី១៥រោច ខែភទ្របទ ជាពិធីមួយសម្រាប់ឧទ្ទិសកុសលទៅដល់បេតជនញាតិដែលបានស្លាប់ទៅ។

នៅក្នុងរយៈពេល១៤ថ្ងៃ នៃការកាន់បិណ្ឌ ឬដាក់បិណ្ឌនេះ ពុទ្ធបរិស័ទចំណុះជើងវត្តទាំងអស់ជាពិសេសក្រុមនីមួយៗដែលបានរៀបចំជា ក្រុមដោយលោកតាអាចារ្យចាត់ចែងនោះ ត្រូវបែងចែកចេញ៣ឬ៤ក្រុមតូចៗ ដើម្បីរៀបចំធ្វើយាគូ ឬធ្វើភត្តាហារជា៣ទៅ៤ឆ្នាំង ស្មើនឹង៣ទៅ៤មុខម្ហូប។ ពេលទូងស្គរចំណាំវស្សា អ្នកនៅក្នុងក្រុមវេននីមួយៗត្រូវចាប់ផ្តើមធ្វើចង្ហាន់ ហើយយាយតាចាស់ៗក្នុងក្រុមវេន ត្រូវជ្រើសរើសយកផ្ទះណាមួយដើម្បីប្រមូលនំនែករៀបចំបាយបិណ្ឌ បាយបត្តបូរ។ រៀបចំរួចហើយត្រូវនាំគ្នាទៅវត្តស្តាប់លោកសូត្រថ្វាយបង្គំធម៌ សុខោ និងធម៌បរាភវសូត្រ។ ចំណែកឯកូនចៅដែលនៅផ្ទះ ត្រូវនាំគ្នាខិតខំដុតដៃដុតជើងបបរ ឬស្លស្លកតាមមុខម្ហូបនីមួយៗ ដោយឡែកពីគ្នា។ លុះដល់ពេលព្រឹកព្រាងអរុណោទ័យត្រូវនាំគ្នារៀបចំខ្លួន កណ្តៀត យួរ កាន់ទូល រែកចង្ហាន់ទៅវត្ត។




នៅក្នុងវត្ត លោកតាអាចារ្យត្រូវរៀបចំពីធីរាប់បាត្រនៅលើឧបដ្ឋានសាលា។ បន្ទាប់មកលោកអាចារ្យជាប្រធាន ត្រូវនាំពុទ្ធបរិស័ទវេរចង្ហាន់ប្រគេនព្រះសង្ឃ វេរបាយបត្តបូរ។ល។ លុះដល់ពេលព្រះសង្ឃធ្វើបត្តានុមោទនគាថាចប់ មេវេនក្រុមនីមួយៗត្រូវរៀបចំម្ហូបអាហារ ចំណីចូលគំនាប់ជូនលោកតាអាចារ្យវត្ត ព្រមទាំងចាត់ចែងភោជនាហារទទួលភ្ញៀវដែលអញ្ជើញទៅបុណ្យនៅក្នុងថ្ងៃ វេនរបស់ខ្លួននោះផងដែរ។

ការប្រគេនចង្ហាន់ដល់ព្រះសង្ឃ ត្រូវបានធ្វើឡើងដើម្បីឧទិសកោសលផលទៅដីដូនជីតាង បងប្អូន និងញាតិទាំង៧សណ្តាន ដែលបានស្លាប់ក្លាយជាប្រេតហើយត្រូវបានជាប់ឃុំនៅក្នុងនរក ។ ក្នុងការបើទ្វានរកនេះ ប្រេតខ្លះ មានឪកាសរួចផុតពីការជាប់ទារុណកម្មនៅនរក ខណៈដែលខ្លះទៀតត្រូវបានគេដោះលែងឲនៅក្រៅនរកជាបណ្តោះអាសន្នដើម្បីទៅទទួលយកនូវចំណី និងកោសលផលបុណ្យដែលកូនចៅបានឧទិសឲ ហើយនឹងត្រូវត្រឡប់ទៅទទួលទុក្ខវេទនានៅក្នុងនរកបន្តទៀត បន្ទាប់ពីពិធីភ្ជុំបិណ្ឌនេះត្រូវបានបញ្ចប់។ ចំពោះញាតិសណ្តានដែលមិនបាននៅក្នុងនរកក៏ដោយក្តី ក៏ត្រូវបានគេចាត់ទុកថាអាចទទួលបាននូវកោសលពីពិធីការឧទិសក្នុងពិធីបុណ្យនេះផងដែរ។

សូមបញ្ជាក់ដែរថា ក្នុងថ្ងៃបុណ្យភ្ជុំ មានរៀបចំកញ្ចប់ចតុប្បច្ច័យ (ស៊ីង) ប្រគេនគ្រប់ភិក្ខុសាមណេរ។ ឯគណៈកម្មការវត្តបានចាត់ចែងនំអន្សម នំគម និងបាយបត្តបូរឲ្យទៅសិស្សគណទុកប្រគេនភិក្ខុសាមណេរតាមចំណែក សម្រាប់ធ្វើចង្ហាន់នៅព្រឹកថ្ងៃបន្ទាប់។ ម្យ៉ាងវិញទៀត ថ្ងៃបុណ្យភ្ជុំបិណ្ឌនេះ កាលពីសម័យបុរាណមានលេងល្បែងប្រណាំងក្របី សេះ ចាប់ពី២-៣គូ ទៅតាមតំបន់រៀងៗខ្លួន[ត្រូវការអំណះអំណាង] ដើម្បីអបអរនៅក្នុងថ្ងៃបុណ្យឆ្លងបង្ហើយ។ លើសពីនេះទៅទៀតក្របី សេះ និងរបស់ដែលត្រូវប្រកួត គេបានតុបតែងលំអដោយប្រេង លាបពណ៌រលើបរលោង មានពាក់ប្រឡៅ កណ្តឹងត្រដោក ឬចង្រ្កងជាដើម។[ត្រូវការអំណះអំណាង] កន្លែងខ្លះទៀតមានលេងល្បែងផ្សេងៗខុសពីនេះ។ ប៉ុន្តែរហូតមកដល់ពេលបច្ចុប្បន្ននេះ ទំនៀមទម្លាប់នេះចេះតែបាត់។ រួញថយបន្តិចម្តង។ សាសនាកាន់តែកន្លងវែងទៅ នាំឲ្យការប្រកាន់ខ្ជាប់ស្ទើរតែបាត់បង់ច្រើនណាស់ដែរ។




បរាភវសូត្រ (អានថា ប៉ៈ រ៉ា ភៈ វៈ) តែងត្រូវបានព្រះសង្ឃសូត្រនៅក្នុងព្រះវិហារជារៀងរាល់ថ្ងៃនាពេលទៀបភ្លឺ នៅក្នុងអំឡុងពេលបុណ្យកាន់បិណ្ឌ។ នៅក្នុងបរាភវសូត្រនេះជារឿយ។គេឮឃ្លាមួយដែលថា នាំឲ្យវិនាស។ ឃ្លានេះជាហេតុនាំឲ្យអ្នកខ្លះមានទស្សនៈថា ពួកគេមិនហ៊ានស្តាប់ធម៌បរាភវសូត្រទេ ព្រោះខ្លាចវិនាស។

តាមពិតបរាភវសូត្រមានន័យថា «មាត្រាដែលពោលពីធម្មជាតិដែលគ្មានក្តីចម្រើន ឬធម៌ជាហេតុនាំឲ្យមានក្តីវិនាស»។ សូត្រនេះមាននៅក្នុងគម្ពីរសុត្តន្តបិដកខុទ្ទកនិកាយ សុត្តនិបាត តតិយភាគទី៥៤ ទំព័រទី៣៦។ ធម៌នេះយើងអាចអះអាងថា មិនមែនធ្វើឲ្យអ្នកស្តាប់បានដល់នូវក្តីវិនាសឡើយ ផ្ទុយទៅវិញធ្វើឲ្យអ្នកស្តាប់បានដឹងច្បាស់ពីមូលហេតុដែលនាំឲ្យវិនាស ហើយឲ្យគេជៀសវាងដើម្បីគេចឲ្យផុតពីក្តីវិនាសហើយ ប្រសិនបើគេមិនបានស្តាប់ធម៌នេះ គេអាចនឹងមិនដឹងពីហេតុដែលនាំឲ្យវិនាសហេតុនេះអាចនឹងប្រព្រឹត្តខុសជាហេតុនាំឲ្យវិនាសទៅវិញទេ។ ក្នុងនោះព្រះពុទ្ធបានបង្រៀនពីហេតុផលសាមញ្ញ។ និងដាក់ស្តែងដូចជាថា បុគ្គលដែលមានវ័យចំណាស់ពេកហើយយកមនុស្សក្មេងជាប្រពន្ធប្តីភាពជាបុគ្គលអកតញ្ញូ មិនដឹងគុណឪពុកម្តាយ អ្នកលេងល្បែង ៣ប្រការ គឺល្បែងស្រី ល្បែងស្រា និងល្បែងភ្នាល់គ្រប់ប្រភេទ ភាពជាអ្នកខ្ជិលច្រអូសជាដើមថាហេតុនាំមកនូវក្តីវិនាស។






# ការបោះបាយបិណ្ឌ

នៅព្រលឹមម៉ោង៤ព្រឹក ប្រជាពលរដ្ឋតែងតែនាំគ្នាដើរទៅវត្តអារ៉ាមនានានៅក្នុងភូមិ ឬនៅក្បែរផ្ទះរបស់ខ្លួន ជាមួយនឹងនំចំណីដែលធ្វើរួចជាស្រេចដាក់ក្នុងចាន ឬស្បោងដើម្បីទៅវត្ត។ ការបោះបាយបិណ្ឌជាជំនឿអរូបិយមួយផងដែរ ដែលប្រជាពលរដ្ឋខ្មែរយើងនិយមធ្វើជារៀងរាល់ព្រឹក ដើម្បីបញ្ជូនឬឧទ្ទិសកុសលឱ្យទៅញាតិសន្តានសាច់សាលោហិតដែល បានចែកឋានទៅបរលោក។

ការបោះបាយបិណ្ឌ ( ការបោះដុំបាយ ) ជាសកម្មភាពមួយដែលមិនទាន់មានឯកភាពគ្នានៅក្នុងសង្គមពុទ្ធសាសនិកនៅឡើយ ដោយអ្នកខ្លះបានចាត់ទុកការបោះបិណ្ឌជាកិច្ចដ៏សំខាន់មួយមិនអាចខានបាននៅក្នុងរដូវបុណ្យកាន់បិណ្ឌនេះ ខណៈដែលអ្នកខ្លះបានអះអាង និងរិះគន់ថា ការបោះបាយបិណ្ឌជាទង្វើមិនត្រឹមត្រូវ ជាភាពខ្ជះខ្ជាយជាការធ្វើមិនគោរពទានជាដើម។ អ្នកដែលជឿថាបោះបាយបិណ្ឌមានប្រយោជន៍គិតថា បោះបាយបិណ្ឌគឺបោះឲ្យពួកប្រេត ( ហេតុនេះទើបនៅតំបន់ខ្លះមិនហៅបាយបិណ្ឌទេ តែហៅថាបាយប្រេត )។ ចំណែកអ្នកពុទ្ធនិយមខ្លះទៀតបានអះអាងថា ការបោះបាយបិណ្ឌជាការធ្វើទានមិនត្រឹមត្រូវតាមការបង្រៀនរបស់ព្រះពុទ្ធឡើយ។







# ការពូនភ្នំខ្សាច់ក្នុងពិធីបុណ្យភ្ជុំបិណ្ឌ

ទាក់ទិននឹងជំនឿដែលពុទ្ធបរិស័ទលើកឡើងអំពីការពូនភ្នំខ្សាច់ នៅអំឡុងពេលបុណ្យភ្ជុំបិណ្ឌនេះ វាជាជំនឿមួយដែលខ្មែរយើងទូទៅយល់ថា វាល្អហើយមានប្រយោជន៍ទើបពួកគាត់ធ្វើ។ ហើយបានដាក់លុយទៅតាមភ្នំខ្សាច់នីមួយៗ ព្រមទាំងអុជធូបស្មាលាកំហុសបាបមួយចំនួនដែលខ្លួនបានសាងឡើង ដោយមិនបានចាប់អារម្មណ៍កន្លងមក។ ការពូនភ្នំខ្សាច់នេះក៏ជាការឧទ្ទិសកុសលមួយជូនដល់ឧបការីជននទាំងឡាយដែលបានលាចាកលោកផងដែរ។





បើតាមគម្ពីព្រះពុទ្ធសាសនាបានចែងថា មនុស្សដែលស្លាប់ទៅតែងទៅកើតទីផ្សេងៗតាមកម្មរបស់ខ្លួន។ មនុស្សចិត្តអាក្រក់ ដែលបានធ្វើបាបកម្មផ្សេងៗ លុះស្លាប់ទៅតែងតែកើតជាប្រេត៤ប្រភេទ គឺប្រេតដែលចិញ្ចឹមជីវិតដោយខ្ទុះឈាម ប្រេតស្រេកឃ្លានអាហារជានិច្ច ប្រេតដែលភ្លើងឆេះជានិច្ច និងប្រេតដែលចិញ្ចឹមជីវិតដោយផលដែលបុគ្គលដទៃឧទ្ទិសទៅឱ្យ។ គេតែងនិយមជ្រើសរើសចំថ្ងៃរនោចខែភទ្របទ ព្រោះពេលវេលានោះព្រះចន្ទពុំសូវមានពន្លឺ ហើយចេះតែងងឹតទៅៗ ព្រោះឱកាសនោះហើយ ដែលយមរាជដោះលែងពួកប្រេតទាំងនោះឱ្យមករស់នៅលាយឡំជាមួយមនុស្សចាំទទួលភោគផលដែលបងប្អូនញាតិសន្តាន ដែលញាតិឧទ្ទិសឱ្យ ព្រោះពួកប្រេតខ្លាចពន្លឺណាស់។ ប្រសិនបើរយៈពេល១៥ថ្ងៃ ពួកប្រេតដើររកគ្រប់វត្តពុំមានឃើញបងប្អូនញាតិសន្តានណាធ្វើបុណ្យបញ្ជូនកុសលទៅឱ្យទេ ពួកគេនឹងអត់បាយអត់ទឹកស្រេកឃ្លានរងទុក្ខវេទនាយ៉ាងក្រៃលែង ហើយនឹងដេរប្រទេចផ្តាសាដល់បងប្អូនញាតិកាទាំងឡាយឱ្យហិនហោចទ្រព្យសម្បត្តិ ព្រាត់ប្រាស់ឪពុកម្តាយ ប្តីប្រពន្ធ កូនចៅ ញាតិផៅទាំងប្រាំពីរសន្តាន។





# បុណ្យស្រដៀងគ្នានេះ

ភ្ជុំបិណ្ឌ ជាពិធីបុណ្យរបស់កម្ពុជា។ ប៉ុន្តែ ក៏មានពិធីបុណ្យសម្រាប់ឧទិសកោសលផលបុណ្យដែលមានភាពស្រដៀងគ្នានេះដែរ ដូចជានៅ សេរីលង្កា( ឧ. ការឧទិសដល់អ្នកដែលស្លាប់ ) ហើយក៏វាមានភាពប្រហាក់ប្រហែលគ្នាទៅនឹង Ghost Festival នៅតៃវ៉ាន់ផងដែរ (ដែលវាទាក់ទងទៅនឹងការបើកទ្វារនរក យមរាជ ជាដើម )។











Scan for read text file

# អរគុណ!

## សមាជិកក្រុម

ឃូ ចន្ទ័មករា . នី បញ្ញារិទ្ធ . អឿន លីលី